# CAMBODIAN CALENDAR 2011

YEAR OF THE RABBIT
CAMBODIAN HISTORICAL ERAS THEME
ខ្មែរប៉ុស្តិ៍ ប្រតិទិនប្រវត្តិសាស្ត្រខ្មែរ
ទូរស័ព្ទលេខ 267-254-8758 E-mail: khmerpostusa@gmail.com



## Cambodian History at a Glance

Angkor Abandonment 1430 — សម័យចតុមុខ Chadomuk Era 1500 — សម័យលង្វែក Longvek Era 1600 — សម័យឧដុង្គ Oudong Era 1800 — Preabat Angdoung 1860 — សម័យបារាំង French Protectorat 1954

### កក្កដា July

| ច័ន្ទ | អង្គារ | ពុធ | ព្រហ. | សុក្រ | សៅរ៍ | អាទិត្យ |
|---|---|---|---|---|---|---|
| | | | | 1 | 2 | 3 |
| 4 | 5 | 6 | 7 | 8 | 9 | 10 |
| 11 | 12 | 13 | 14 | 15 | 16 | 17 |
| 18 | 19 | 20 | 21 | 22 | 23 | 24 |
| 25 | 26 | 27 | 28 | 29 | 30 | 31 |

### សីហា August

| ច័ន្ទ | អង្គារ | ពុធ | ព្រហ. | សុក្រ | សៅរ៍ | អាទិត្យ |
|---|---|---|---|---|---|---|
| 1 | 2 | 3 | 4 | 5 | 6 | 7 |
| 8 | 9 | 10 | 11 | 12 | 13 | 14 |
| 15 | 16 | 17 | 18 | 19 | 20 | 21 |
| 22 | 23 | 24 | 25 | 26 | 27 | 28 |
| 29 | 30 | 31 | | | | |

### កញ្ញា September

| ច័ន្ទ | អង្គារ | ពុធ | ព្រហ. | សុក្រ | សៅរ៍ | អាទិត្យ |
|---|---|---|---|---|---|---|
| | | | 1 | 2 | 3 | 4 |
| 5 | 6 | 7 | 8 | 9 | 10 | 11 |
| 12 | 13 | 14 | 15 | 16 | 17 | 18 |
| 19 | 20 | 21 | 22 | 23 | 24 | 25 |
| 26 | 27 | 28 | 29 | 30 | | |

## Cambodian History at a Glance

សម័យសង្គមរាស្ត្រនិយម 1954 Sangkum Reast Niyum 1970 — សម័យសាធារណរដ្ឋ Khmer Republic 1975 — សម័យកម្ពុជាប្រជាធិបតេយ្យ Kampuchea Democrat Period 1979 — សម័យកម្ពុជាប្រជាមានិត រដ្ឋកម្ពុជា People's Republic of Kampuchea & State of Cambodia 1993 — សម័យព្រះរាជាណាចក្រកម្ពុជា បច្ចុប្បន្ន Kingdom of Cambodia 1993-Present

### តុលា October

| ច័ន្ទ | អង្គារ | ពុធ | ព្រហ. | សុក្រ | សៅរ៍ | អាទិត្យ |
|---|---|---|---|---|---|---|
| 31 | | | | | 1 | 2 |
| 3 | 4 | 5 | 6 | 7 | 8 | 9 |
| 10 | 11 | 12 | 13 | 14 | 15 | 16 |
| 17 | 18 | 19 | 20 | 21 | 22 | 23 |
| 24 | 25 | 26 | 27 | 28 | 29 | 30 |

### វិច្ឆិកា November

| ច័ន្ទ | អង្គារ | ពុធ | ព្រហ. | សុក្រ | សៅរ៍ | អាទិត្យ |
|---|---|---|---|---|---|---|
| | 1 | 2 | 3 | 4 | 5 | 6 |
| 7 | 8 | 9 | 10 | 11 | 12 | 13 |
| 14 | 15 | 16 | 17 | 18 | 19 | 20 |
| 21 | 22 | 23 | 24 | 25 | 26 | 27 |
| 28 | 29 | 30 | | | | |

### ធ្នូ December

| ច័ន្ទ | អង្គារ | ពុធ | ព្រហ. | សុក្រ | សៅរ៍ | អាទិត្យ |
|---|---|---|---|---|---|---|
| | | | 1 | 2 | 3 | 4 |
| 5 | 6 | 7 | 8 | 9 | 10 | 11 |
| 12 | 13 | 14 | 15 | 16 | 17 | 18 |
| 19 | 20 | 21 | 22 | 23 | 24 | 25 |
| 26 | 27 | 28 | 29 | 30 | 31 | |

-1 មករា ចូលឆ្នាំសកល, -7 មករា, -18 កុម្ភៈ មាឃបូជា, -14-15-16 មេសា ចូលឆ្នាំថ្មី
-1 ឧសភា, -13-14-15 ឧសភា, -21 ឧសភា, -1 មិថុនា
-18 មិថុនា, -24 កញ្ញា, -26-27-28 កញ្ញា ពិធីភ្ជុំបិណ្ឌ, -29 តុលា
-30-31 តុលា, -9 វិច្ឆិកា, -9-10-11 វិច្ឆិកា, -10 ធ្នូ

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៧ ខែធ្នូ ឆ្នាំ២០១០

## NRP Disappointed After Proposed Name Rejected

In a statement yesterday, the Norodom Ranariddh Party expressed its "strong disappointment" that Funcinpec had rejected a proposal to merge the royalist parties under the name Funcinpec 81 despite renewed efforts by Prince Norodom Ranariddh to win them over. "We are disappointed that Funcinpec Secretary-General Nhiek Bun Chhay rejected Norodom Ranariddh's request to merge the royalist parties to create one new party. He did not sit and talk yet. Why did he reject the request in this way?" said NRP spokesman Pen Sangha.

After Prince Ranariddh's return to political life last month, the NRP and Funcinpec have formed an alliance, with Prince Ranariddh proposing a merger under the name Funcinpec 81, an apparent attempt to associate a new party with his personal history by marking it with the year of the royalist movement's founding. Prince Ranariddh was expelled from Funcinpec in 2006. "I think the name of the new party is not important. We must understand each other first," Funcinpec President Keo Puth Rasmey said yesterday. (*Eang Mengleng*)

## គណបក្ស នរោត្តម រណឫទ្ធិ ខកចិត្តចំពោះការច្រានចោល

ដោយ អ៊ាង ម៉េងឡេង

THE CAMBODIA DAILY

នៅក្នុងសេចក្តីថ្លែងការណ៍មួយកាលពីម្សិលមិញ គណបក្ស នរោត្តម រណឫទ្ធិ បានសម្តែងនូវ "ការខកចិត្តយ៉ាងខ្លាំង" ដែលគណបក្សហ៊្វុនស៊ិនប៉ិចបានច្រានចោលសំណើមួយសុំឱ្យរួមបញ្ចូលបណ្តាគណបក្សរាជានិយមក្រោមឈ្មោះ ហ៊្វុនស៊ិនប៉ិច៨១ថ្មី បើមានការខិតខំប្រឹងប្រែងជាថ្មីដោយព្រះអង្គម្ចាស់ នរោត្តម រណឫទ្ធិ ក្នុងការបញ្ចុះបញ្ចូលពួកគេក៏ដោយ ។

លោក ប៉ែន សង្ហា អ្នកនាំពាក្យរបស់គណបក្ស នរោត្តម រណឫទ្ធិ បានមានប្រសាសន៍ថា "យើងខកចិត្តដែលលោក ញឹក ប៊ុនឆៃ អគ្គលេខាធិការគណបក្ស នរោត្តម រណឫទ្ធិ បានច្រានចោលសំណើ របស់ព្រះអង្គម្ចាស់ នរោត្តម រណឫទ្ធិ ក្នុងការរួមបញ្ចូលបណ្តាគណបក្សរាជានិយមដើម្បីបង្កើតគណបក្សថ្មីមួយ ។ គាត់មិនទាន់អង្គុយចរចាគ្នាផង ។ ហេតុអ្វីបានជាគាត់ច្រានចោលសំណើតាមវិធីបែបនេះ? ។

បន្ទាប់ពីការយាងត្រឡប់របស់ព្រះអង្គម្ចាស់ រណឫទ្ធិ ទៅរកជីវិតនយោបាយវិញកាលពីខែមុននោះ គណបក្ស នរោត្តម រណឫទ្ធិ និងគណបក្ស ហ៊្វុនស៊ិនប៉ិច បានបង្កើនសម្ព័ន្ធភាពមួយ ដោយព្រះអង្គម្ចាស់ស្នើឱ្យមានការរួមបញ្ចូលគ្នាមួយក្រោមឈ្មោះ ហ៊្វុនស៊ិនប៉ិច៨១ ដែលជាការប៉ុនប៉ងមួយ ដើម្បីបញ្ចូលគ្នាជា គណបក្សថ្មីមួយជាមួយនឹងប្រវត្តិរបស់ព្រះអង្គផ្ទាល់ដោយសម្គាល់ឆ្នាំនៃការបង្កើតចលនារាជានិយម ។ ព្រះអង្គម្ចាស់ រណឫទ្ធិ ត្រូវបានបណ្តេញចេញពីគណបក្សហ៊្វុនស៊ិនប៉ិច ក្នុងឆ្នាំ២០០៦ ។

លោក កែវ ពុទ្ធរស្មី ប្រធានគណបក្សហ៊្វុនស៊ិនប៉ិច បានមានប្រសាសន៍កាលពីម្សិលមិញថា "ខ្ញុំគិតថា ឈ្មោះគណបក្សថ្មីនេះមិនសំខាន់ទេ ។ យើងត្រូវតែយល់គ្នាទៅវិញទៅមកជាមុនសិន" ៕

(អ៊ាង ម៉េងឡេង)

## Annual Voter Registration to Continue Despite Drawbacks

BY EANG MENGLENG

THE CAMBODIA DAILY

Speaking at a press conference yesterday in Phnom Penh, National Election Committee President Im Suosdey announced that the government would continue to require voters to register annually despite a report claiming that doing so might suppress voter turnout.

Last month, the Committee for Free and Fair Elections released a report claiming that the yearly registration process places an unnecessary burden on voters and allows commune officials to keep opposition party members from voting. The report, which claimed that thousands were kept from the polls, suggested that the government issue voter registration cards that are good for two years in order to eliminate some of the hassle of the voting process.

"We could not accept the Comfrel proposal to cancel the 1018 form [the annual registration form] because we use it only for the voters who don't have identification cards and to keep track of the number of the voters," said Mr Suosdey yesterday.

Mr Suosdey added that 1018 forms would continue to be a necessity because the Interior Ministry does not issue ID cards, which can be used to prove residency, to most people. The form currently requires a photograph, a family history and a testimony to current residency signed by two witnesses.

Comfrel Executive Director Koul Panha said he would continue to track voter rolls and reiterated the importance of monitoring the NEC.

"In 2009, our organization found that roughly 1 million names had been removed from NEC voter rolls," said Mr Panha, adding that Comfrel has yet to review the 2010 voter list.

NEC officials rejected Comfrel's 2009 finding, saying far fewer names had been removed.

SRP lawmaker and spokesman Yim Sovann said yesterday that in ignoring the Comfrel report, the NEC has exposed itself as an instrument of the CPP.

"We think there needs to be a change because the NEC is acting to help the CPP win elections," he said. "We want voter lists to be monitored by political parties other than the CPP and by outside observers."

## ការចុះឈ្មោះអ្នកបោះឆ្នោតប្រចាំឆ្នាំនឹងបន្តថ្វីបើមានគុណវិបត្តិក៏ដោយ

ដោយ អ៊ាង ម៉េងឡេង

THE CAMBODIA DAILY

ថ្លែងនៅឯសន្និសីទសារព័ត៌មាននៅក្នុងទីក្រុងភ្នំពេញកាលពីម្សិលមិញ លោក អ៊ឹម សួស្តី ប្រធានគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតបានប្រកាសថា រដ្ឋាភិបាលនឹងនៅតែតម្រូវឱ្យអ្នកបោះឆ្នោតចុះឈ្មោះប្រចាំឆ្នាំ ថ្វីបើមានរបាយការណ៍មួយអះអាងថា ការធ្វើដូច្នេះអាចរារាំងចំនួនអ្នកបោះឆ្នោតក៏ដោយ ។

កាលពីខែមុន គណៈកម្មាធិការសម្រាប់ការបោះឆ្នោតដោយសេរី និងយុត្តិធម៌បានចេញរបាយការណ៍មួយដែលអះអាងថា ដំណើរការចុះឈ្មោះប្រចាំឆ្នាំនេះ ដាក់បន្ទុកមិនចាំបាច់ដល់អ្នកបោះឆ្នោត ហើយធ្វើឱ្យមន្ត្រីឃុំសង្កាត់រារាំងសមាជិកគណបក្សប្រឆាំងពីការបោះឆ្នោត ។

លោក អ៊ឹម សួស្តី បានមានប្រសាសន៍កាលពីម្សិលមិញថា "យើងមិនអាចទទួលយកសំណើរបស់ គណៈកម្មាធិការខុមហ្វ្រែលសុំឱ្យលុបទម្រង់១០១៨ (ជាទម្រង់ចុះឈ្មោះបោះឆ្នោតប្រចាំឆ្នាំ) បានទេ ពីព្រោះយើងប្រើទម្រង់នេះសម្រាប់តែអ្នកបោះឆ្នោតដែលមិនមានអត្តសញ្ញាណប័ណ្ណ និងដើម្បីតាមដានចំនួនអ្នកបោះឆ្នោតតែប៉ុណ្ណោះ" ។

លោក អ៊ឹម សួស្តី បានបន្ថែមថា ទម្រង់១០១៨ នេះនឹងនៅតែចាំបាច់ ពីព្រោះក្រសួងមហាផ្ទៃមិនចេញអត្តសញ្ញាណប័ណ្ណដែលអាចប្រើដើម្បីបញ្ជាក់ពីលំនៅដ្ឋានដល់ប្រជាជនជាច្រើននោះបានទេ ។ បច្ចុប្បន្ននេះតម្រូវឱ្យមានរូបថតមួយសន្លឹក សៀវភៅគ្រួសារ និងភស្តុតាងដែលបញ្ជាក់ពីលំនៅដ្ឋានបច្ចុប្បន្នដែលត្រូវចុះហត្ថលេខាដោយសាក្សី២នាក់ ។

លោក គល់ បញ្ញា ជានាយកប្រត្តិបត្តិនៃគណៈកម្មាធិការខុមហ្វ្រែល បានមានប្រសាសន៍ថា លោកនឹងបន្តតាមដានបញ្ជីឈ្មោះបោះឆ្នោត ហើយលោកបានថ្លែងលើងវិញអំពីសារៈសំខាន់នៃការឃ្លាំមើលគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត ។

លោក គល់ បញ្ញា បានមានប្រសាសន៍ថា "កាលពីឆ្នាំ២០០៩ អង្គការរបស់យើងបានរកឃើញថា ឈ្មោះប្រហែលមួយលាននាក់ត្រូវបានលុបចេញពីបញ្ជីឈ្មោះរបស់គណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត" ដោយលោកបន្ថែមថា គណៈកម្មាធិការខុមហ្វ្រែលមិនទាន់បានពិនិត្យបញ្ជីឈ្មោះបោះឆ្នោតឆ្នាំ២០១០នៅឡើយទេ ។

ក្រុមមន្ត្រីគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតបានបដិសេធរបាយការណ៍ឆ្នាំ២០០៩ របស់គណៈកម្មាធិការខុមហ្វ្រែល ដោយលើកឡើងថា ឈ្មោះតិចជាងនេះឆ្ងាយណាស់ត្រូវបានលុបចេញ ។

លោក យឹម សុវណ្ណ ជាសមាជិកសភា និងជាអ្នកនាំពាក្យគណបក្ស សមរង្ស៊ី បានមានប្រសាសន៍កាលពីម្សិលមិញថា ក្នុងការមិនទទួលស្គាល់របាយការណ៍របស់គណៈកម្មាធិការខុមហ្វ្រែល គណៈកម្មា ធិការជាតិរៀបចំការបោះឆ្នោត បានបង្ហាញឱ្យគេឃើញថា ខ្លួនឯងជាឧបករណ៍មួយរបស់គណបក្សប្រជាជនហើយ ។

លោក យឹម សុវណ្ណ បានមានប្រសាសន៍ថា "យើងគិតថា ចាំបាច់ត្រូវមានការផ្លាស់ប្តូរមួយ ពីព្រោះគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត កំពុងធ្វើសកម្មភាពជួយឱ្យគណបក្សប្រជាជនឈ្នះឆ្នោត ។ យើងចង់ឱ្យគណបក្សនយោបាយនានា និង អ្នកសង្កេតការពីខាងក្រៅឃ្លាំមើលបញ្ជីឈ្មោះបោះ ឆ្នោត ជាជាងគណបក្សប្រជាជនកម្ពុជា ៕

## Report Suggests Pending Change of US Embassy Chief

A shakeup within the US Asian diplomatic corps could see the departure of Ambassador Carol Rodley as US President Barack Obama looks to check the growth of Chinese influence in East Asia, a media report claimed yesterday. According to an article posted to the website of the Washington-based journal Foreign Policy, the Obama administration's strategy of increased engagement in Asia is likely to be carried out by new players, including Principal Deputy Assistant Secretary for East Asian and Pacific Affairs Joe Donovan. "If the White House decides to give [the ambassadorship to South Korea] to a political appointee (traditionally, Seoul has gone to a career diplomat), then Donovan would probably be offered the ambassadorship of Cambodia," said the article, citing "multiple administration sources." The US Embassy in Phnom Penh declined comment yesterday. The last five US ambassadors to Cambodia have served 32 months on average. Ms Rodley has served 26 since taking office in October 2008. Foreign Affairs Ministry spokesman Koy Kuong said Cambodia would continue to court both US and Chinese support. "For Cambodia, we still have good relations with both China and the US, and we have to try to keep our friends because we are a nonaligned nation," he said. (*Andrew Burmon*)

## របាយការណ៍ស្នើឱ្យរង់ចាំចំពោះការផ្លាស់ប្តូរឯកអគ្គរាជទូតអាមេរិក

ដោយ ANDREW BUNRMON

THE CAMBODIA DAILY

របាយការណ៍មួយរបស់ប្រព័ន្ធផ្សព្វផ្សាយបានអះអាងថា ការរុះរើនៅក្នុងអង្គទូតរបស់សហរដ្ឋ អាមេរិកប្រចាំនៅអាស៊ីអាចនឹងមានការចាកចេញរបស់លោកស្រីឯកអគ្គរដ្ឋទូត ខារ៉ូល រ៉ដលី នៅពេលដែលប្រធានាធិបតី បារ៉ាក់ អូបាម៉ា ស្វះស្វែងត្រួត ពិនិត្យពីកំណើនឥទ្ធិពលរបស់ចិននៅអាស៊ីខាងកើត ។

យោងតាមអត្ថបទមួយដែលដាក់ក្នុងវិបសាយរបស់ទស្សនាវដ្តី Foreign Policy ដែលមានមូលដ្ឋាននៅក្នុងក្រុងវ៉ាស៊ីនតោន បានឱ្យដឹងថាយុទ្ធសាស្ត្ររបស់រដ្ឋាភិបាលលោក អូបាម៉ា ដើម្បីបង្កើនការចូលរួមនៃអាស៊ីទំនងត្រូវអនុវត្តដោយអ្នកដើរតួថ្មីៗ ដោយរួមទាំងលោក ចូ ដូណូវ៉ាន់ ជាឧបការីរងទទួលបន្ទុកកិច្ចការនៅអាស៊ីខាងកើត និងប៉ាស៊ីហ្វិកផងដែរ ។

ដោយដកស្រង់ "ប្រភពជាច្រើននៅក្នុងជួររដ្ឋាភិបាល" អត្ថបទនេះបានលើកឡើងថា "ប្រសិនបើសេតវិមានសម្រេចប្រគល់តំណែងជាឯកអគ្គរដ្ឋទូតប្រចាំកូរ៉េខាងត្បូងទៅឱ្យអ្នកនយោបាយម្នាក់ (ជាធម្មតាក្រុងសេអ៊ូលបានធ្លាក់ទៅលើអ្នកការទូតអាជីពនោះ) ដូចលោក ដូណូវ៉ាន់ ប្រហែលជានឹងត្រូវបានប្រគល់តំណែងជាឯកអគ្គរដ្ឋទូតប្រចាំនៅកម្ពុជា" ។

កាលពីម្សិលមិញ ស្ថានទូតសហរដ្ឋអាមេរិកក្នុងក្រុងភ្នំពេញ បានបដិសេធមិនធ្វើអត្ថាធិប្បាយអំពីការផ្លាស់ប្តូរមន្ត្រីសំខាន់ ឬគោលនយោបាយណាមួយនោះទេ ។ ឯកអគ្គរដ្ឋទូតសហរដ្ឋអាមេរិកមុនៗចំនួន៥រូបនៃកម្ពុជា បានបម្រើការងារជាមធ្យមរយៈពេល៣២ខែ ។

លោកស្រី ខារ៉ូល រ៉ដលី បម្រើការងារបានរយៈពេល២៦ខែចាប់តាំងពីបានចូលកាន់តំណែងក្នុងខែតុលា ឆ្នាំ២០០៨មក ។

លោក គុយ កួង ដែលជាអ្នកនាំពាក្យក្រសួងការបរទេសកម្ពុជា បានមានប្រសាសន៍ថា ប្រទេសកម្ពុជានឹងព្យាយាមបន្តដើម្បីទទួលបានការឧបត្ថម្ភគាំទ្រពីសហរដ្ឋអាមេរិក និងចិន ។

លោកបានមានប្រសាសន៍ថា "សម្រាប់ប្រទេសកម្ពុជា យើងនៅតែមានទំនាក់ទំនងល្អទាំងជាមួយ ប្រទេសចិន និងសហរដ្ឋអាមេរិក ហើយយើងត្រូវ ព្យាយាមរក្សាមិត្តភាពរបស់យើង ពីព្រោះយើងជាប្រទេសមួយដែលមិនចូលបក្សសម្ព័ន្ធ" ៕




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន** (**តពីលេខមុន**)

**ឆ្នាំ ១៩៨៧**

ឆ្នាំនេះអង្គការ KEG បានប្តូរឈ្មោះថា KAMPUCHEAN Working Group ជាអង្គការសម្ងាត់មួយ រៀបរៀងដោយប្រទេសថៃ, ម៉ាឡេស៊ី និង សឹង្ហបូរី ដែលគាំទ្រដោយស៊ីអាយអេ ជាអ្នកផ្តល់អាវុធយុទ្ធភ័ណ្ឌចម្បាំង។ ព័ត៌មានយោធា និងផែនការណ៍សង្គ្រាមដល់ក្រុមមិនមែនកុម្មុយនិស្ត ដែលជាសម្ព័ន្ធមិត្តរបស់ក្រុមខ្មែរក្រហម។ ប្រទេសថៃ និងប្រទេសម៉ាឡេស៊ីជាអ្នកបង្ហាតហ្វឹកហ្វឺនយោធា ប្រទេសសឹង្ហបូរីជាអ្នកផ្គត់ផ្គង់អាវុធតាមរយៈអង្គការមួយឈ្មោះ Chartered Industries ហើយអង្គការ KWG នេះមានស្ថានីយ៍វិទ្យុពីរផ្សាយពីក្រៅប្រទេសចូលទៅកម្ពុជា ។

**•១២ មករា ៨៧** : សីហនុ ទៅធ្វើទស្សនកិច្ចនៅប៉ូការ៉េស ហើយទទួលសារពីប្រធានាធិបតី ឆាវឆេស្គូ ដែលផ្ញើមកពីវៀតណាម ដែលស្នើឱ្យមានការចរចាដើម្បីឱ្យមានការឈប់បាញ់គ្នា ។ សម្តេច សីហនុ បានបដិសេធសំណើរនោះ ។

**•២៤ មករា** : លោក សឺង សាន នៅពេលធ្វើទស្សនកិច្ចនៅ សាយធូ (SITE2) បានចោទប្រកាន់វៀតណាមថា បានសម្លាប់ខ្មែរក្រោម ដែលរស់នៅភាគខាងត្បូងវៀតណាម។

**•២៤ កុម្ភៈ** : កងទ័ពរដ្ឋកម្ពុជាប្រជាធិបតេយ្យ បានចាប់នាវានេសាទថៃបួនគ្រឿងនៅក្បែរកោះខ្មែរ "កោះចារ៍"។

**•១០ មីនា** : រដ្ឋមន្ត្រីការបរទេស រុស្ស៊ី "អេឌូអាស្ដេវ៉ាណាតហ្សេ" មកធ្វើទស្សនកិច្ចនៅកម្ពុជា ។

**•២៥ មីនា** : មានការចុះហត្ថលេខារវាងអាស៊ានជាមួយរដ្ឋាភិបាលសម្ព័ន្ធកម្ពុជាប្រជាធិបតេយ្យ ដោយមានជប៉ុន និងចិន ចូលរួមដើម្បីបង្កើតគណៈកម្មាធិការទំនាក់ទំនងមួយ សម្រាប់អភិវឌ្ឍន៍ធនធានអណ្តូងប្រេងកាតនៅឯនាយសមុទ្រខ្មែរ។

**•០៩ មេសា** : ខៀវ ធិរិទ្ធ ប្រធានកាកបាទក្រហមកម្ពុជាប្រជាធិបតេយ្យ ទៅធ្វើទស្សនកិច្ចផ្លូវការនៅជប៉ុន ។

**•១២ មេសា** : នៅទីក្រុងញូវយ៉ក ក្រុមដែលនៅសល់ពីការសម្លាប់រង្គាល "ហូឡូកូស" បានត្រូវក្រុមបាតុករ ២០០នាក់ ទាមទារឱ្យយក ប៉ុល ពត និងថ្នាក់ដឹកនាំខ្មែរក្រហមឯទៀតៗ ទៅតុលាការអន្តរជាតិតាមសន្ធិសញ្ញាឆ្នាំ ១៩៤៨ ។

**•១៧ មេសា** : កងទ័ព FNLPK របស់លោក សឺង សាន បានត្រូវចោទប្រកាន់ថា បានប្រព្រឹត្តអំពើរំលោភសិទ្ធិមនុស្សនិងលួចរត់ពន្ធ។

**•១៩ មេសា** : រដ្ឋកម្ពុជា បើកសិទ្ធិឱ្យអាចផ្ញើរប្រាក់ពីបរទេសចូលស្រុកខ្មែរសម្រាប់ឯកជនបាន។

**•២៦ មេសា** : កងទ័ពខ្មែរក្រហមវាយប្រហារលើទ័ព សីហនុនិយម។

**•០៧ ឧសភា** : ដើម្បីប្រឆាំងតបនឹងទ័ពខ្មែរក្រហម សម្តេច សីហនុ ប្រកាសឈប់ធ្វើប្រធានរដ្ឋាភិបាលសម្ព័ន្ធប្រជាធិបតេយ្យក្នុងរយៈពេល១ឆ្នាំ។ ទ្រង់នរោត្តម រណឫទ្ធិ ជាព្រះរាជបុត្រឡើងកាន់តំណែងជាតំណាងហ្វ៊ុនស៊ិនប៉ិច ក្នុងរដ្ឋាភិបាលសម្ព័ន្ធត្រីភាគី ។

**•០៨ ឧសភា** : នៅភ្នំពេញដំឡើងស្ថានីយ៍ទំនាក់ទំនងទូរស័ព្ទ តេឡិច នៅទីអាគារព្រះវិហារ កាតូលិក ដែលខ្មែរក្រហមបានកំទេចចោល។ ថ្ងៃនោះជាលើកដំបូងហើយដែលកម្ពុជាមានទំនាក់ទំនងទូរស័ព្ទទៅក្រៅប្រទេស គិតចាប់ពីឆ្នាំ១៩៧៥មក។

**•១២ ឧសភា** : ការស្រាវជ្រាវរបស់សាស្ត្រាចារ្យ ឃៀន ធិរ៉ាវីដ នៃសកលវិទ្យាល័យ ជូឡាឡុងកន និយាយថា ការដកទ័ពវៀតណាមពីកម្ពុជា គឺមានអ្នកចូលមកកម្ពុជាជំនួសវិញ ។

**•០២ មិថុនា** : ការផ្សព្វផ្សាយព័ត៌មានរបស់រដ្ឋាភិបាលសម្ព័ន្ធត្រីភាគីនិយាយថា សម្តេចសីហនុ នៅជាប្រធាននៃរដ្ឋាភិបាលសម្ព័ន្ធដដែល ។

**•០៣ មិថុនា** : អង្គការ "លើកលែងទោសអន្តរជាតិ" បានផ្សាយពីការរំលោភសិទ្ធិមនុស្សនៅកម្ពុជា អត្ថបទ ១៥២ទំព័រសំរាប់រដ្ឋកម្ពុជា ហើយ ៨ទំព័រ សម្រាប់រដ្ឋាភិបាលសម្ព័ន្ធ ។ អ្នកសរសេរសេចក្តីរាយការណ៍នោះឈ្មោះ ស្ទីវ ហ៊ីដ័រ ដែលជាម្ចាស់អត្ថបទជាច្រើន កោតសសើរពីខ្មែរក្រហមកាលពីឆ្នាំ១៩៧០-១៩៧៥។

**•០៤ មិថុនា** : កងទ័ពចលនា FNLPK ចូលជំរំអង្គការសហប្រជាជាតិនៅខាវអ៊ីដាង ហើយប្លន់ជនភៀសខ្លួន។

**•១៥ មិថុនា** : សម្តេច សីហនុ ថ្លែងថា "អនាគតកម្ពុជា អាចនឹងស្ថិតនៅក្រោមកណ្តាប់ដៃ ថៃ និងវៀតណាម ឬក៏នៅក្នុងកណ្តាប់ដៃខ្មែរក្រហម" ព្រះអង្គបានទិទានសហគមន៍អាស៊ានថា "ទៅការពារអ្វីដែលគេមិនអាចការពារបាន"។

**•២៤ មិថុនា** : ក្នុងឱកាសសវនាការជាមួយអ្នកម្នាង មូនីក សីហនុ នាយករដ្ឋមន្ត្រីចិន បញ្ជាក់ពីការគាំទ្ររបស់ប្រទេសចិន ដល់សម្តេចសីហនុ និងរដ្ឋាភិបាលព្រះអង្គ ហើយថែមទាំងសង្កត់ពាក្យទៅលើភាពចាំបាច់នៃឯកភាពចលនាសម្ព័ន្ធប្រឆាំងនឹងវៀតណាម។

**•២៩-៣០ មិថុនា** : នៅប្រ៊ុចសែល មានការប្រជុំរបស់អង្គការក្រៅរដ្ឋាភិបាលចំនួន១៥ ដើម្បីបង្កើត "វេទិកាអន្តរជាតិនៃអង្គការក្រៅរដ្ឋាភិបាលនៅកម្ពុជា" ។

**•២៩ កក្កដា** : ជួបគ្នានៅក្រុងហូជីមិញ រវាងរដ្ឋមន្ត្រីការបរទេសឥណ្ឌូនេស៊ី និងវៀតណាម ចំនួន៦ម៉ោង ស្តីពីបញ្ហាកម្ពុជា។ មានការព្រមព្រៀងគ្នាឱ្យមានការទំនាក់ទំនងក្រៅផ្លូវការ ឱ្យមានការប្រជុំក្រៅផ្លូវការ " Cocktail Party" រវាងភាគីជម្លោះខ្មែរ លាតសន្ធឹងដល់ភាគីប្រទេសចិនខាងផង។

**•៣០ កក្កដា** : សម្តេច សីហនុ បានលុបចោលការជួបជាមួយ ហ៊ុន សែន នៅព្យុងយ៉ាង ។

**•១៣ សីហា** : រដ្ឋមន្ត្រីការបរទេសនៃប្រទេសទាំងបីនៃឥណ្ឌូចិន យល់ព្រមតាមសំណើរឥណ្ឌូនេស៊ីឱ្យមានការទំនាក់ទំនងក្រៅផ្លូវការរវាងភាគីដែលមានទំនាស់។

**•១៧ សីហា** : ទស្សនកិច្ចលោក សឺន សាន នៅ "សាយ2" ដើម្បីស្វែងរកសំណោះស្រាយការបែកបាក់នៃចលនា FNLPK ដែលកងទ័ពបានធ្លាក់ចុះពី១ម៉ឺន២ពាន់ មកនៅត្រឹមតែ២ពាន់នាក់។

(**នៅមានតលេខក្រោយទៀត**)




# ពុទ្ធប្បវត្តិអមដោយរូបភាព

# A Pictorrial Biography of Saky amuni Buddha

- ❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- ❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សឹត .អេ.លី
- ❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- ❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

១០៦- ជនខ្លះកាត់បន្ថយការបរិភោគអាហារប្រចាំថ្ងៃរបស់គេបន្តិចម្តងៗរហូតដល់ឈប់បរិភោគអ្វីទាំងអស់ ហើយរូបកាយនៅសល់តែស្បែក និងឆ្អឹងតែប៉ុណ្ណោះ។ អ្នកខ្លះធ្វើទារុណកម្មខ្លួនដោយឈរតែជើងម្ខាងយ៉ាងស្ងប់ស្ងាត់។ អ្នកខ្លះទៀតចង្អុលតែដៃម្ខាងទៅលើមេឃរហូតដល់ចរន្តឈាមក្នុងដៃស្ងួតគាំងលែងរត់។ ខ្លះទៀតក្តាប់ដៃទាំងពីរចូលគ្នាយ៉ាងណែនក្តន់ ដោយមិនលា ឬបន្ធូរដៃទាល់តែសោះ ធ្វើដូច្នេះយូរៗទៅក្រចកដៃដុះវែងឡើងៗ ចាក់ទម្លុះបាតដៃធ្លាយទៅចេញទៅខ្នងដៃទាំងសងខាង។ ទុក្ករៈជនខ្លះទៀតដេកសន្ធឹងលើបន្ទះក្តារ ដែលបោះដែកគោលមុតស្រួចច្រូងច្រាង។

១០៧- ព្រះសិទ្ធត្ថទ្រង់ខំព្យាយាមយ៉ាងខ្លាំងតាមវិធីផ្សេងៗជាច្រើន ដើម្បីធ្វើជាទុក្ករបុគ្គលម្នាក់ដែរ។ ព្រះអង្គទ្រង់ព្រះតំរិះថា បើព្រះអង្គទ្រង់ខំបង្កើនសេចក្តីទុក្ខលំបាកឱ្យកើនច្រើនដល់កំរិតណាមួយ ព្រះអង្គប្រាកដជានឹងបានត្រាស់ដឹងជាមិនខាន។ ដូច្នេះនៅពេលព្រះអង្គយាងមក **ឧរុវេលប្រទេស** តាមផ្លូវទៅកាន់ដែនមគធៈ, ព្រះអង្គទ្រង់បានទតឃើញព្រៃមួយកន្លែងស្ងប់ស្ងាត់ល្អណាស់ មានផ្ទៃដីរាបស្មើល្អ ព្រមទាំងដើមឈើទាំងឡាយមានមែកត្រសុំសាខា មានផ្កាស្លឹកល្អស្រស់បំព្រងនៅក្បែរនោះមានស្ទឹងមួយមានទឹកថ្លាយង់សែនត្រជាក់ហូរមិនដាច់។ ចំណែកភូមិ **សេនានិគម** ក៏តាំងនៅមិនឆ្ងាយពីទីនោះដែរ ដែលអាចឱ្យព្រះអង្គទ្រង់និមន្តទៅបិណ្ឌបាតបានយ៉ាងស្រួល ព្រះអង្គទ្រង់សម្តេចព្រះទ័យគង់នៅទីនោះដើម្បីបំពេញទុក្ករកិរិយាយ៉ាងលំបាក ដោយប្រើនូវបច្ចេកទេសពិសេសៗអស្ចារ្យជាច្រើនដើម្បីឱ្យបានសំរេចនូវការត្រាស់ដឹង។

១០៨- នៅពេលជាមួយគ្នានោះ មានជនទាំងឡាយប្រាំនាក់ផ្សេងទៀតគឺ **កោណ្ឌញ្ញៈ, ភទ្ទិយៈ, វប្បៈ, មហានាម** និង **អស្សជិ** ដែលបានបួសជាសមណៈរួចនិមន្តតាមព្រះសិទ្ធត្ថទៅឧរុវេលប្រទេស។ សមណៈទាំងប្រាំអង្គជឿថា ព្រះសិទ្ធត្ថប្រាកដជានឹងបានត្រាស់ដឹងមិនខានតាមការប្រព្រឹត្តទុក្ករកិរិយា ដោយការប្តេជ្ញាយ៉ាងប្តូរផ្តាច់បែបនេះ ហើយពួកគេជឿថា នៅពេលណាព្រះអង្គទ្រង់បានសំរេចការត្រាស់ដឹងហើយព្រះអង្គនឹងបង្រៀនដល់ពួកក្នុងនាមជាសាវ័ករបស់ព្រះអង្គនូវអ្វីដែលព្រះអង្គទ្រង់បានសំរេចហើយនោះ។

១០៩- ព្រះសិទ្ធត្ថទ្រង់ធ្វើទុក្ករកិរិយាតាមរបៀបធូរៗពិសេសៗជាច្រើនបែប បន្ទាប់មកទ្រង់ក៏ចាប់ផ្តើមបន្ថយនូវអាហារបន្តិចម្តងៗ រហូតទីបំផុតព្រះអង្គទ្រង់លែងសោយអ្វីទាំងអស់។ ព្រះអង្គប្រែទៅជាស្គមស្គាំងយ៉ាងខ្លាំងដែលមើលទៅឃើញសុទ្ធតែឆ្អឹងទាំងអស់ ការប្រព្រឹត្តដ៏តឹងរ៉ឹងប៉ុណ្ណឹងហើយ ព្រះអង្គនៅតែមិនរួញរាមិនធ្លាក់ទឹកចិត្តសូម្បីដល់បន្តិចឡើយ។ មានថ្ងៃមួយនោះ នៅពេលដែលព្រះអង្គកំពុងចំរើនភាវនាធម៌តែមួយអង្គឯង ព្រះអង្គទ្រង់ខ្សោយខ្សោះអស់ព្រះកាយពលរហូតដល់សន្លប់ដួលដេកស្តូកស្តឹងលែងដឹងខ្លួន។ ពេលនោះមានក្មេងគង្វាលចៀមម្នាក់បានដើរតាមនោះប្រទះឃើញព្រះអង្គ។ វាសន្និដ្ឋានថាព្រះសិទ្ធត្ថមុខជានឹងដល់នូវទីវង្គតដ៏ឆាប់ៗនេះពុំខាន ព្រោះព្រះអង្គទ្រង់ខ្សោយខ្លាំងណាស់ មនុស្សទាំងឡាយនៅទីនោះបានដឹងថា អរិយបុគ្គលអង្គនេះទ្រង់មិនឆាន់អ្វីទាល់តែសោះអស់ពេលជាច្រើនថ្ងៃមកហើយ។ (**តទៅលេខក្រោយ**)

- ❖ Original Illuatration and Naration in Thai by Gunapayuta.
- ❖ Translation into English by A Lu.
- ❖ Coloring by Yann Fang Lee
- ❖ Translation into Khmer by Bhikkhu Kong Am.

106- Some of them reduced their daily food intake till they were eating almost nothing at all and became only skin and bones. Some stood silently on one foot. Some raised one of their hands, pointing to the sky until poor blood circulation finally dried and crippled their arm. Some clasped both hands tightly them, so that the finger-nails completely penetrated the palms and grew through to the back of the hands. Some of them slept on boards pierced and fully covered with sharp nails.

107- Siddhartha did try, in various ways. To become an ascetic. He thought that it he increased his hardship to a certain degree; he would most certainly be come enlightened. So when he came to Uruvilva on his way to Magadha and found there a nice quiet place with level ground and lush trees, cool water flowing in a nearby stream, and a Senani Village not far away where he could go for alms, he decided to remain at that place to practice austere asceticism, using many special tech-niques.

108- At the time there were also five other persons-Kaundinya, Bhadrika, Baspa, Mahanama and Asvajit-who had become Sramanas and followed Siddhartha to Uruvilva. They believed that Siddhartha would finally attain enlightenment by practicing asceticism with such complete devotion, and that when he became enlightened he would naturally teach them, as his disciples, what he hat attained.

109- Siddhartha practiced a wide variety of special forms of asceticism and they began to reduce his diet until finally he arrived at the point where he was eating nothing at all. He became so thin that his whole bony frame was clearly visible, yet this hard practice did not discourage him one bit. One day, while he was meditating alone, he fainted because of exhaustion. At that time a shepherd boy just happened to pass by. He immediately surmised that Siddhartha was about to die because he had fasted too much, for the people of that place all knew that this holy man had eaten nothing for many days. *(Continued After Issue)*

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)
រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

វិធីប្រមូលសតិទៅលើកម្មវត្ថុសមាធិ ដូចជាទៅលើដង្ហើម, វេទនាលើរូបកាយ, រូបព្រះអាទិទេព, រូបផ្កា, អណ្តាតភ្លើងទៀន, ពន្លឺក្នុងខ្លួន, លំហបរិយាកាស, សម្លេងអូម OM, ពាក្យពេចន៍មន្ត្រ (Mantra), ពាក្យបួងសួងព្រះអាទិទេព Prayer ។ល។ វិធីទាំងអស់នោះមានការប្រមូលសតិ (Concentration) ដូចគ្នារួមគ្នា។ គឺដោយសារវិធីប្រមូលសតិនេះហើយ ទើបកើតលំហនេះឡើង។ តើកើតលំហតាមរបៀបណា? ដូចខ្ញុំជំរាបខាងលើស្រាប់ ការប្រមូលសតិតាមបែបណានោះបង្កើតបានជាលោកថ្មីមួយក្នុងខ្លួនយើង ។

ឧទាហរណ៍ (ទី១) ការប្រមូលសតិលើដង្ហើម : ការប្រមូលសតិលើដង្ហើមមានន័យថា កុងស្យែនស មនុស្សផ្ចង់បញ្ចាំងតែលើដង្ហើមមួយគត់ នេះជាលោកតែមួយគត់។ បើហាត់កាន់តែយូរទៅលោកថ្មីនេះកាន់តែរីកធំឡើង វាវាទទីតែម្នាក់ឯងលើផ្ទៃចិត្តទាំងមូលពុំអនុញ្ញាតឱ្យរឿងរ៉ាវផ្សេងៗចូលមកបាន ។ លោកនេះបានក្លាយទៅជាលំហពីព្រោះដង្ហើម មានគុណភាព «ទទេស្អាត គ្មានពាក់ព័ន្ធទៅនឹងរឿងអ្វីឡើយ» ។ លំហមានន័យថា ជាចន្លោះទទេ គ្មានរឿងរ៉ាវនានា គ្មានលំហូរគំនិត គ្មានប្រតិកម្ម គ្មានការរំជួលចិត្ត គឺជាកន្លែងដែលអ្នកសមាធិអាចសំរាកសំរួលចិត្ត។ បើហាត់កាន់តែយូរទៅដង្ហើមប្រែទៅជាទីជំរកដ៏សមគួរសំរាប់មនុស្សយើងសំរាកលំហែពីភាពខ្វល់ខ្វាយនៃម៉ែមីរ និងការធ្វើប្រតិកម្មក្នុងចិត្តខ្លួនឯង ហើយគេឈានឡើងដំណាក់កាលមួយទៀត ពោលគឺជីវិតរស់នៅក្រៅប្រព័ន្ធម៉ែមីរ ប្រកបដោយភាពស្ងប់ និងប្រាជ្ញា (Living beyond thoughts, reactions, emotions, living with peace and inner intelligence) ។ នេះជាការពន្យល់អំពីការរំដោះការរកឃើញព្រះនិព្វានក្នុងខ្លួនពិតប្រាកដ ពុំមែនជាការស្រមើស្រមៃឡើយ។ គួរយើងទាំងអស់គ្នាពិនិត្យបន្ថែមពាក្យលំហ ឬ ទទេនេះ។ បើអ្នកពិនិត្យអត្ថន័យលំហ ឬទទេ តាមកញ្ចក់នៃការយល់ដឹងធម្មតានោះអ្នកនឹងធ្លាក់ទៅក្នុងភាពមើលស្រាលដោយនិយាយថា «លំហឬទទេ គឺគ្មានអ្វីទាំងអស់ តើខិតខំប្រតិបត្តិសមាធិដ៏យូរ ដ៏តឹងតែង ដ៏យ៉ាប់យឺនបែបនេះសំរាប់តែទៅដល់ទីមួយជាទីទទេ ជាទីគ្មានខ្លឹមសារ ជាទីសូន្យជាទីគ្មានន័យប៉ុណ្ណោះទេឬអ្វី?» ។ តាមពិតការពិសោធន៍ជាក់ស្តែងបានឱ្យអ្នកសមាធិយល់ដឹងថាទីលំហ ឬទីទទេនេះ ជាទីផុតទុក្ខ ជាទីរួចរដោះ ផុតពីការក្បៀបសង្កត់របស់ប្រព័ន្ធម៉ែមីរដូចរៀបរាប់ខាងដើមស្រាប់។ ហើយលើសពីនេះទៅទៀត គឺកន្លែងចន្លោះទទេនេះហើយដែលកុងស្យែនសបរិសុទ្ធមានឱកាសនឹងបញ្ចេញរូបរាង គុណសម្បត្តិ គុណភាពដ៏ឧត្តុង្គឧត្តមរបស់ខ្លួន ឱ្យអ្នកសមាធិពិសោធឃើញដោយផ្ទាល់ភ្នែកស្រស់។ គុណភាពទាំងនោះមានដូចជា ប្រាជ្ញាភ្លឺស្វាង សុខស្ងប់ មេត្តា ករុណា មុទិតា ឧបេក្ខា បរមសុខ ។

ឧទាហរណ៍(ទី២) ការសូត្រឬទន្ទេញពាក្យ «អូម» : ពាក្យ «អូម» នេះជាលោកសម្លេង (Vibration of sound) បើហាត់កាន់តែយូរទៅលោក សម្លេងនេះវាវាទទីលាតសន្ធឹងគ្រប់គ្រងផ្ទៃចិត្តទាំងមូល។ វាក៏មាននាទីដូចករណីយដង្ហើមខាងលើដែរ។ វានឹងបង្កើតបានជាលំហក្នុងផ្ទៃចិត្តមនុស្ស ។ មនុស្សអាចប្រើកន្លែងនោះសំរាប់សំរាកលំហែពីភាពខ្វល់ខ្វាយនៃម៉ែមីរបានយ៉ាងប្រសិទ្ធិភាព។ ដូច្នេះហើយបើអ្នកសូត្រធម៌អ្វីមួយដដែលៗទៅធម៌នេះនឹងប្រែទៅជាលំហបាន។ ការសូត្រពាក្យបី.បួន ឬប្រាំម៉ាត់ដដែលៗ (ពាក្យពេជមន្ត្រ ឬម៉ាន់ត្រា) ដូចជា OMMANI-PADMEHUM (ធម៌សូត្ររបស់ព្រះសង្ឃទីបេ) OMNAMAHSHIVAYA (ធម៌សូត្ររបស់អ្នកកាន់សាសនាហិណ្ឌូ) គឺមានទិសដៅបង្កើតលំហក្នុងចិត្តមនុស្សនេះឯង សំរាប់គ្រប់គ្រងចិត្តមនុស្សនេះឯង ។ តើអ្នកជ្រាបឬទេ អំពីគុណប្រយោជន៍នៃការហាត់ប្រមូលសតិបែបនេះ។ ទាំងនេះជាឧបករណ៍ដ៏អស្ចារ្យដែលមនុស្សជាតិរកឃើញជាយូរលង់មកហើយសំរាប់គ្រប់គ្រងចិត្តមនុស្ស (The great discovery of human being) ។ សូមចងចាំថា ការសូត្រពាក្យម៉ាន់ត្រា ខាងលើនេះប្រព្រឹត្តទៅដោយពុំពិចារណាអ្វីឡើយ (ការពិចារណាជាម៉ែមីរ) សំខាន់ធ្វើឱ្យច្រើនដង ម៉ឺនសែនលានដង រហូតដល់វាក្លាយភាពខ្ទរ (Vibration) គន្លងទម្លាប់ផុសពីក្នុងមក ដោយឯកឯង ពេលនោះមនុស្សមានសមត្ថភាពថ្មីមួយដ៏អស្ចារ្យ ។

**(១០) វិធីប្រតិបត្តិនានារបស់មនុស្សជាតិឆ្ពោះទៅកាន់ពិភពកុងស្យែនសបរិសុទ្ធ :**

មនុស្សជាច្រើនជំនាន់បានធ្វើដំណើររុករក ស្រាវជ្រាវពិភពកុងស្យែនសបរិសុទ្ធនេះ ។ ពួកគេរកឃើញវិធីប្រតិបត្តិផ្សេងៗ សំដៅឱ្យសំរេចបានពិសោធន៍ដោយផ្ទាល់នូវកុងស្យែនសបរិសុទ្ធក្នុងរូបកាយនេះ។ នៅក្នុងអក្សរសិល្ប៍បូរាណជាច្រើន បានលើកនិទានអំពីចំណុចនេះ ដូចជា :

រឿងពួកអាទិទេពនិងពួកយក្សពួតដៃគ្នាកូរសមុទ្រទឹកដោះ រុករកទឹកអម្រិត សំរាប់ឱ្យជីវិតរស់នៅជាអមតៈ ។

រឿងពុទ្ធប្រវត្តិដែលរៀបរាប់អំពីព្រះសិទ្ធត្ថលះបង់សុភមង្គលផ្ទាល់ ទ្រព្យសម្បត្តិ កិត្តិយស ស្វែងរកការត្រាស់ដឹង ។

លោកគ្រូ ថាំងចេង ធ្វើដំណើរស្វែងរកព្រះធម៌ (រឿងបូរាណចិន) ។

ខ្ញុំសូមរៀបរាប់ខ្លីៗនូវវិធីប្រតិបត្តិនានា ដែលមនុស្សបានប្រើក្នុងដំណើររុករកនេះ :

**(ក) ព្រហ្មញ្ញសាសនា :**

ពួកព្រាហ្មណ៍មានវិធីប្រតិបត្តិ៨យ៉ាងដូចតទៅ : (១) Yama, (២) Niyama (ទាំងពីរនេះជាផ្នែករក្សាសីល), (៣) Asana របៀបហាត់ពត់កាយឱ្យមាំមួនក្នុងនោះមាននិយាយអំពីរបៀបអង្គុយសមាធិផង, (៤) Pranayama ការហាត់ពិនិត្យដង្ហើម, (៥) Pratyahara ការហាត់ប្រមូលសតិទៅក្នុងខ្លួន, (៦) Dharana ការហាត់សំរួចសតិ, (៧) Meditation ការហាត់អង្គុយសមាធិ, (៨) Samadhi : absorption or unity consciousness ការសំរេចត្រាស់ដឹង និងបានឃើញព្រះអាទិទេពក្នុងខ្លួន ។ (តទៅលេខក្រោយ)

ទស្សនៈវិស័យ :

ដោយ : ម៉ែម យីន

# អ្នកមិនស្គាល់ថ្ងៃទី៧មករា អ្នកនោះជាសត្វ



•••ពាក្យថា "អ្នកណាមិនស្គាល់ថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩ អ្នកនោះជាសត្វ" នេះគឺជាសំដីថ្លែងរបស់ប្រមុខរដ្ឋាភិបាលនៅក្នុងឱកាសថ្ងៃធ្វើបុណ្យរំលឹកឧបការគុណកងទ័ពសាសន៍យួន បានលើកទ័ពចូលវាយលុកលុយប្រទេសខ្មែរបានជោគជ័យ រួចបានតែងតាំងក្រុមមេដឹកនាំដែលមានទឹកចិត្តឈ្មោះត្រង់ស្វាមីភក្តិលើកងទ័ពយួនកាលពីថ្ងៃទី៧ មករា ១៩៧៩ រហូតមកដល់សព្វថ្ងៃកន្លងមកបានគ្រប់៣១ឆ្នាំមកហើយ ។

សេចក្ដីថ្លែងនៃប្រមុខរដ្ឋាភិបាលនូវពាក្យមួយឃ្លាខាងលើនេះ គឺជាឆន្ទៈដ៏អង់អាចនៃលោកដែលបានយល់ច្បាស់ថាថ្ងៃទី៧ មករា ១៩៧៩ នេះជាជោគជ័យដ៏ធំធែងណាស់ សំរាប់រូបលោកក្នុងបុព្វហេតុជួយរំដោះប្រទេសជាតិ និងសង្គ្រោះជនជាតិខ្មែរឱ្យបានរួចរស់ជីវិតសារជាថ្មីឡើងវិញ ក្រោយពីបានត្រូវក្រុមខ្មែរក្រហមកម្ពុជាប្រជាធិបតេយ្យ បានប្រើអំណាចផ្ដាច់ការ ការសម្លាប់ជនជាតិខ្មែរ អស់ប្រមាណជិតបួន (៤)លាននាក់ ដែលជាសោកនាដកម្មមួយកម្រមាននៅលើលោកនេះ ។

ម្យ៉ាងទៀតការយល់ឃើញយ៉ាងច្បាស់របស់ប្រមុខរដ្ឋាភិបាលថ្ងៃទី៧ មករា នេះ បានបញ្ជាក់បង្ហាញនូវឧបការគុណដ៏ធំធេងណាស់ ជនជាតិខ្មែរទូទាំងប្រទេសត្រូវតែទទួលស្គាល់មហាករុណាធិគុណនៃកងទ័ពយួនជារៀងរហូតដល់ម៉ឺនឆ្នាំតទៅ ។ ដូច្នេះទើបប្រមុខរដ្ឋាភិបាលត្រូវតែថ្លែងប្រាប់ទៅដល់ជនជាតិខ្មែរគ្រប់មជ្ឈដ្ឋាន ថា បើមិនទទួលស្គាល់ថ្ងៃទី៧ មករានេះ ចាត់ទុកជាសត្វ ដូច្នេះវាសមរម្យធ្វើជាមេដឹកនាំតំណាងប្រទេសជាតិខ្មែរពេញលក្ខណៈបានឬ ទេ?

ទោះបីប្រមុខរដ្ឋាភិបាលខ្មែរសព្វថ្ងៃមានអំណាចមហាសាលប៉ុណ្ណា មានបរមងារជាមហាអគ្គសេនាបតីតេជោ មានលុយកាក់ទ្រព្យសម្បត្តិយ៉ាងមហាសាល និងមានបក្សពួកដ៏ខ្ពង់ខ្ពស់យ៉ាងណាក៏ដោយ លោកមិនត្រូវប្រើពាក្យប្រមាថមើលងាយដល់ជនជាតិខ្មែរដូច្នេះទេ ។

ធម្មជាតិបានបង្កើតរូបមនុស្សមកឱ្យមានត្រចៀកពីរសំរាប់ស្ដាប់ឱ្យឮទាំងសងខាង បើមនុស្សណាចុកត្រចៀកទាំងពីរមិនស្ដាប់ ឬចុកម្ខាង ស្ដាប់តែម្ខាងមនុស្សនោះពុំបានពេញលក្ខណៈជាមនុស្សពិតប្រាកដនោះទេ ។

**ទី២.** មនុស្សមានភ្នែកពីរសំរាប់មើលឱ្យឃើញទាំងពីរទៅលើរបស់អ្វីៗសព្វសារពើ ព្រមទាំងទង្វើ និងការប្រព្រឹត្តរបស់ខ្លួន ដូចជាមើលទៅលើជនជាតិសាសន៍នានា ដែលរស់នៅលើប្រទេសខ្មែរឱ្យច្បាស់ ថា អ្នកណាជាជាតិខ្មែរ អ្នកណាជាជាតិយួន ជាតិចិន ជាតិកូរ៉េ ជាតិថៃជាដើម ។ល។ បើកាលណាមើលឃើញតែជាតិ ចិន យួន កូរ៉េ ប៉ុន្តែមើលមិនឃើញជាតិខ្មែរ ដែលជាជាតិសាសន៍របស់ខ្លួន ពេលនោះប្រមុខរដ្ឋាភិបាលនោះ គឺពិតជាមនុស្សមានតែម្ខាង ទេ ដែលចាត់ទុកថាជាមនុស្សខ្វាក់ទៅហើយដែរ ។

**ទី៣.** មនុស្សមានមាត់មួយ និងក្បាលមួយ គេពុំដែលឃើញមនុស្សមានមាត់ពីរ និងក្បាលពីរនោះទេ ។ ដូច្នេះមាត់មួយនេះត្រូវតែនិយាយនូវពាក្យសំដីដែលប្រកបដោយគុណធម៌ សីលធម៌ សច្ចធម៌ មនុស្សធម៌ និងយុត្តិធម៌ ទើពេញលក្ខណៈជាមនុស្សល្អពិតប្រាកដ ផ្ទុយទៅវិញ បើកាលណាមាត់មនុស្សនេះ និយាយពាក្យសំដីល្អផង អាក្រក់ផង មនុស្ស ឬមេដឹកនាំប្រភេទនេះ ត្រូវចាត់ទុកថា ជាជនក្រឡិចក្រឡុច ល្ងិល្ងើគ្មានបានការ ហើយមិនសមធ្វើជាមេដឹកនាំ ឬធ្វើជាមនុស្សធម្មតាបានទេ ។

រីឯក្បាលក៏ដូចគ្នាដែរ ក្បាលមួយមានន័យថា បើមនុស្ស ឬមេដឹកនាំជាជាតិខ្មែរ ត្រូវតែក្បាលតែមួយ គឺក្បាលខ្មែរពិតប្រាកដ មិនត្រូវមានក្បាលជាខ្មែរ ជាយួន ចិន កូរ៉េផងបានទេ ។

ដូច្នេះធម្មជាតិ ដែលបានបង្កើតត្រចៀកពីរ ភ្នែកពីរ មាត់មួយ និងក្បាលមួយឱ្យមាននៅលើរូបកាយមនុស្សគ្រប់ប្រភេទ គ្រប់សញ្ជាតិនៅលើផែនដី សូម្បីតែពពួកសត្វតិរច្ឆានក៏ដូចគ្នាដែរ គឺដើម្បីតម្រូវសេចក្ដីត្រូវការ និងជួយសម្រួលដល់ជីវិតរបស់មនុស្ស ពុំត្រូវឱ្យមនុស្សណា ទោះមានបរមងារជាអ្វីក៏ដោយមិនត្រូវប្រព្រឹត្តធ្វើឱ្យខុសឆ្គងទាំងរំលោភបំពានបានឡើយ ។

ទង្វើ និងការប្រព្រឹត្តដ៏សែនមហាអាក្រក់ទាំងប៉ុន្មានខាងលើ បានបញ្ជាក់បង្ហាញយ៉ាងច្បាស់ថា ក្រុមដឹកនាំខ្មែរសព្វថ្ងៃ គឺប្រៀបដូចជាហ្វូងសត្វសិង្ហតោ ហ្វូងសត្វខ្លាធំ ឆ្កែព្រៃ ពុំមែនជាក្រុមមនុស្សដ៏មានឧត្តមគតិ សតិស្មារតីជាមនុស្សជាតិដ៏មានបុគ្គលិកលក្ខណៈមានឧត្តមភាពលក្ខណៈប្រកបដោយគុណសម្បត្តិ គុណធម៌ពេញបរិបូរជាមនុស្សជាតិពិតនោះបានទេ ។

តួយ៉ាងដូចមានព្រះបន្ទូលនៃព្រះគ្រប់ព្រះអង្គក្នុង គ្រប់សាសនា បានសម្ដែងថា "មនុស្សណាបានធ្វើ និងប្រព្រឹត្តនូវអំពើអាក្រក់ស្មោគគ្រោក ព្រៃផ្សៃ កាចសាហាវឃោរឃៅ កាប់សម្លាប់មនុស្សដូចគ្នា មនុស្សនោះ គឺជាសត្វតិរច្ឆាន ហើយត្រូវទទួលនូវបាបកម្មនោះយ៉ាងមហាសែនវេទនាបំផុតនៅក្នុងភ្លើងនរកអវចីជារៀងរហូត ។

**សេចក្ដីសន្និដ្ឋាន :** លោកប្រមុខរដ្ឋាភិបាលបាននិយាយថា "អ្នកណាមិនស្គាល់ថ្ងៃទី៧ មករា ១៩៧៩ អ្នកនោះជាមនុស្សមិនស្គាល់សច្ចធម៌នៃប្រវត្តិសាស្ត្រ ហើយអ្នកឯងមិនមែនមនុស្សទេ គឺជាសត្វ ជាសត្វ ជាសត្វ ពាក្យសំដីដ៏សែនអសុរស និងគួរឱ្យខ្ពើមនេះ សមតែជាសំដីពួកមនុស្សពាលបាតផ្សារ ពុំមែនជាសំដីមនុស្សដែលមានមុខតំណែងកំពូលជាតំណាងប្រទេសជាតិមួយដូច្នេះទេ ។

មនុស្សលើពិភពលោក ធ្វើជាសេចក្ដីជាប្រធានាធិបតីក្ដី ជាមន្ត្រីគ្រប់ជាន់ថ្នាក់ក្ដី ដែលប្រកបដោយគតិបណ្ឌិត ពុំដែលមានការចោទប្រកាន់ពីសំណាក់ មតិជាតិ និងអន្តរជាតិដូច្នេះទេ ដោយសារតែមេដឹកនាំទាំងអស់នោះ ជាមនុស្សពុំដែលពាក្យសំដីអសុរសមហាស្មោគគ្រោកទៅលើមនុស្សជាតិដូចគ្នា ដូច្នេះទេទៀតផង ។

ពាក្យសំដីមេដឹកនាំខ្មែរសព្វថ្ងៃ និយាយប្រមាថមើលងាយដ៏មហាសែនទាបថោកនេះ បានបញ្ជាក់បង្ហាញឱ្យឃើញថា មិនខុសគ្នាពីមេដឹកនាំប្រទេសនានាមួយចំនួនដូចជា ប្រទេសហ្វីលីពីន ប្រទេសឥណ្ឌូនេស៊ី ប្រទេសថៃ ប្រទេសយូហ្គូស្លាវី ប្រទេសអៀរ៉ាក់ជាដើម រួចហើយមេដឹកនាំទាំងនោះ ត្រូវតែបានទទួលលទ្ធផលនៃមហាបាតុកម្មដ៏អាក្រក់នោះមកវិញដែរ ដែលនឹងមកអូសទាញទម្លាក់ទៅក្នុងជ្រោះជ្រៅនៃភ្លើងនរកអវចីនៅពេលឆាប់ៗនេះហើយ ។

អាស្រ័យហេតុនេះ ទោះបីប្រមុខរដ្ឋាភិបាលខំប្រឹងស្រែកដោះសារថាខ្លួនឯងជាទេវតា បានទៅនាំកងទ័ពជាតិយួនរាប់សែននាក់ អ្នកជំនាញការ ទីប្រឹក្សារាប់ពាន់នាក់មកជួយរំដោះប្រទេស និងសង្គ្រោះជីវិតខ្មែរឱ្យរួចពីក្រុមមហាឃាតករនោះយ៉ាងណាក៏ដោយ វាពុំអាចកំបាំងពីព្រះទិព្វចក្ខុនៃស្ដេចសកទេវរាជឥន្ទ្រាធិរាជដែលជាស្ដេចនៃតុលាការយុត្តិធម៌របស់ព្រះអង្គបានទេ ៕

**"ទស្សនៈវិស័យគឺជាទស្សនៈផ្ទាល់របស់អ្នកនិពន្ធ មិនមែនឆ្លុះបញ្ចាំពីទស្សនៈរបស់ខ្មែរប៉ុស្តិ៍នោះទេ" ។**

ទស្សន៍ទាយជោគជតារាសី

# ជោគជតារាសីលោកអ្នកថ្ងៃទី១៤-២៧ មករា ២០១១

### ឆ្នាំជូត : (ពង្សទេព្តាប្រុស ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងដ៏ខ្លាំងយ៉ាងណាក្តីក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច ។ ចំពោះកំលោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕

### ឆ្នាំឆ្លូវ : ( ពង្សមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងជាមុនទើបពុំមានការថ្លោះធ្លោយ។ ក្រៅពីនោះបើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា៕

### ឆ្នាំខាល : ( ពង្សយក្សស្រី ធាតុឈើ )

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លីផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមជាលាយល័ក្ខណ៍អក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

### ឆ្នាំថោះ : ( ពង្សមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឲ្យគ្នាទៅវិញទៅមកទើបមិនអាចប្រេះឆាគ្នាបាន ៕

### ឆ្នាំរោង : (ពង្សទេព្តាប្រុស ធាតុមាស)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ។ ដូច្នេះបើលោកអ្នកមានទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

### ឆ្នាំម្សាញ់ : (ពង្សមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ីអាចរីបៗបន្តិចឡើងវិញក្តី តែអ្វីដែលលោកអ្នកគួរប្រយ័ត្នប្រយែងនោះ គឺនឹងមានមនុស្សសម្តីផ្អែមបង់បោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរសស្ត្រី គឺមិនត្រូវឆាប់ត្រចៀកទន់ជឿទុកចិត្តគេពេកទេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបតែសេចក្តីសុខនឹងគ្នា ៕

### ឆ្នាំមមី : (ពង្សទេព្តាស្រី ធាតុភ្លើង)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះជាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសាររពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវ ។ ចំពោះគូស្វាមីភរិយាចូរប្រយ័ត្នអ្នកក្រៅមកញុះញង់ ៕

### ឆ្នាំមមែ : (ពង្សទេព្តាស្រី ធាតុមាស)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះដោយទំនាយទាយថា អាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឲ្យសោះ ព្រោះកាលបើបានធ្លាក់ដល់ដៃគេហើយ គឺគ្មានថ្ងៃបានវិលត្រឡប់វិញឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានជលប៉ះទង្គិចគ្នាបន្តិចបន្តួច ៕

### ឆ្នាំវក : (ពង្សយក្សប្រុស ធាតុដែក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ តែចូរកុំមានចិត្តលោភលន់ឲ្យសោះ ព្រោះការលោភលន់នាំមកនូវក្តីវិនាសអន្តរាយ។ចំពោះគូស្នេហ៍មានភាពល្អូកល្អិនយល់ចិត្តគ្នាល្អណាស់ ៕

### ឆ្នាំរកា : (ពង្សយក្សប្រុស ធាតុដែក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់។ ក្នុងរយៈពេលនេះបុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្តីផ្អែមអាចលោយទ្រព្យឆាប់។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

### ឆ្នាំច : ( ពង្សយក្សស្រី ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺអាចទទួលបានផលសម្រេចត្រឹមតែពាក់កណ្តាលប៉ុណ្ណោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំឡើយ ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចសព្វមួយដង ៕

### ឆ្នាំកុរ : (ពង្សមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្តីបំប៉ាច់បំប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេងៗអាចកើតចេញពីពាក្យសម្តី ។ ចំពោះគូស្វាមីភរិយាចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីចូលជ្រៀតជ្រែក ៕



សោភ័ណភាព

# ស្បែកមុខស្រស់ថ្លាដោយសារថ្នាំបុរាណ

កាលណាស្បែកមិនលោងស្រស់ស្អាត ពេលចេញដំណើរទៅណាមកណាក៏មិនស្រឡះនៅក្នុងចិត្តដែរ ។ ក៏ប៉ុន្តែចាប់ពីពេលនេះទៅ អ្នកប្រាកដជាលែងមានការបារម្ភទៀតហើយ ព្រោះខាងក្រោមនេះជារូបមន្តជួយឲ្យស្បែករលើបរលោងបានយ៉ាងងាយបំផុត ។

-យកចេកអំបូង១ផ្លែទៅកិនលាយជាមួយទឹកឃ្មុំមួយកូនពែង និងក្រោយពេលធ្វើរួចរាល់ហើយនាំវាមកលាបបំពោកនៅលើស្បែកមុខទុកចោលពី១៥-២០នាទីទើបលាងចេញ ។ វិធីនេះនឹងជួយឲ្យស្បែករបស់អ្នករលោងស្រស់ថ្លាស្ទើររកកន្លែងតិះគន់គ្មាន ។

-មើមខ្ទឹមក្រហមយកវាមកដំ ឬចិតជាចំណិតស្តើងៗបន្ទាប់មកយកវាទៅលាបថើៗលើស្បែកមុខទុកចោលប្រមាណជា១០នាទី ទើបលាងជម្រះចេញ ។ ប្រសិនបើបានធ្វើបែបនេះរៀងរាល់ថ្ងៃវាជួយលុបបំបាត់មុនមុខស្នាមជ្រីវជ្រួញ និងអាចមុ៍រុយបានទៀតផងដែរ ។

-យកក្រូចឆ្មារ១ស្លាបព្រាកាហ្វេ លាយជាមួយស៊ុតពណ៌ស១ស្លាបព្រាកាហ្វេលាយចូលគ្នា រួចវាយឲ្យបែកសព្វយកទៅលាបលើស្បែកមុខទុកចោលពី១៥-២០នាទីទើបលាងជម្រះចេញ ៕

# ទទួលទានបែបណាទើបមិនឆាប់ចាស់

**រឿងសម្ផស្សនៅស្រស់ស្អាត និងមានវ័យក្មេងខ្ចី សុទ្ធតែជាបំណងប្រាថ្នារបស់ស្ត្រីគ្រប់រូប ហើយប្រសិនបើមានរូបមន្តពិសេសជួយនាងឲ្យនៅវ័យក្មេងខ្ចីមិនឆាប់ចាស់ទៀតនោះកាន់តែត្រូវចំណូលចិត្តថែមទៀត ។**

**ប្រសិនបើនាងកំពុងតែមានបំណងប្រាថ្នាបែបនេះពេលនេះ យើងមានរូបមន្តពិសេសក្នុងការទទួលទានអាហារបែបណាឲ្យនៅមានវ័យក្មេងខ្ចីបានយូរមកជូនដូចខាងក្រោមនេះ៖**

**១-ស្វាយ :** នៅក្នុងផ្លែ ស្វាយមានបេការ៉ូទីនជួយថែបំប៉នឲ្យស្បែកមានសុខភាពល្អ ព្រោះវាជួយក្មោចដល់ការសាងស្បែកកាយរួមទាំងស្បែកក្បាល ដើម្បីសងជំនួសស្បែកចាស់ ដែលប្រែសភាពគ្រើមក្រៀម ស្ងួត និងរដិបរដុបឲ្យប្រែមកមានសភាពសើមត្រជាក់ ហើយទន់រលោង ធ្វើឲ្យស្បែកមាន ដូចកាលពីកុមារភាពពិតៗ ។

**២-ផ្លែបេក :** ការទទួលទានផ្លែបេកបានក្នុងបរិមាណមួយសមរម្យវាជួយបញ្ចៀសអាការ ជ្រុះសក់ ព្រមទាំងជួយពង្រឹកឫសសក់ឲ្យសក់បានស្ថិតនៅលើក្បាលរយៈពេលយូរ ។

**៣-គ្រាប់ធញ្ញជាតិ :** ប្រសិនបើបានទទួលទានគ្រាប់ធញ្ញជាតិរៀងរាល់ព្រឹកដែលក្នុងនោះពោរពេញទៅដោយវីតាមីនB2 ជួយទប់ស្កាត់ការផលិតជាតិប្រេងហួសតម្រូវការនៃក្រពេញផលិតក្នុងរាងកាយ ដែលជាមូលហេតុមួយធ្វើឲ្យសរសៃសក់ស្តើង និងឡើងប្រេង (ខ្លាញ់) ។

**៤-ត្រីសែលម៉ុន :** ការទទួលត្រីសែលម៉ុនដាក់អំបិលពេលផ្សេងអាហារសមុទ្រ ឬបន្លែស្រស់វាជួយទប់ស្កាត់អាការរបកនៃស្បែកបាន ។

**៥-សណ្តែកដីបំពង :** ការទទួលទានសណ្តែកដីបំពងវាជួយពន្យារអាការសក់ចេញស្កូវដោយគួរទទួលទានមុនពេលទទួលទានអាហារប្រចាំពេល ។ នៅក្នុងសណ្តែកដីពោរពេញទៅដោយវីតាមីន B អាចទប់ស្កាត់ការប្រែប្រួលនៃពណ៌សរសៃសក់ ព្រមទាំងជួយធ្វើឲ្យស្បែកក្បាលល្អជាងមុនទៀតផង ។

**៦-ត្របែក :** នៅក្នុងផ្លែត្របែកសម្បូរទៅដោយវីតាមីន C ជួយរក្សាខលឡាជេន ដែលជាប្រភពសាងនៃប្រូតេអ៊ីននៅខាងក្រោមស្បែក ។ ដោយឡែកការទទួលទានផ្លែល្ហុង ក្រូចរួមទាំងផ្លែឈើប្រចាំថ្ងៃ ក៏អាចជួយបង្កើនវីតាមីន C បានដូចគ្នា ៕

# Khmer Post Classified

**To Place an ad, call (267) 253-3947**
**e-mail KhmerPostUSA@gmail.com**

**IMPORTANT INFORMATION:** All classified advertising is subject to the terms and conditions of the applicable Khmer Post rate and to approval and acceptance at Khmer Post. Khmer Post reserve right to edit, reject, cancel or reclassify an ad, and reserve the right to convert any classified advertising to alternative formats for publication. It is the advertiser's sole responsibility to check each ad the first day it is published. Khmer Post assumes no responsibility for any reason, for any error or omission in any ad



តមកទំព័រទី ០៧

## តើក្រមង៉ុយជានរណា?...

ច្រៀងទូន្មានដល់មនុស្សផងទាំងពួង លោកតែងតែមានកូនបង្ហិច និងឈើច្រត់កាន់តាមជាប់ខ្លួនជានិច្ច ។ គេពិបាកនឹងរក្សាទុកនូវរូបថតរបស់កវីយើងណាស់ ក៏ប៉ុន្តែយើងអាចស្រមៃអំពីរូបរាងរបស់គាត់ ដែលជាមនុស្សម្នាក់មានមាឌធំ ដុះក្បាលពោះ កាត់សក់ជ្រោងខ្លី ទុកពុកមាត់ខាងលើ និយមស្លៀកសំពត់ចងក្បិន ពាក់អាវកត្រង់ ឡេវធំៗ ពាក់ស្បែកជើងផ្ទាត់ និងមួកសំបុក ។ គឺរូបរាងនេះហើយ ដែលសិល្បករម្នាក់បានឆ្លាក់ និងត្រូវបានតម្កល់នៅបូជនីដ្ឋានអ្នកភិរម្យភាសាអ៊ូ ហៅង៉ុយ នាទីក្រុងភ្នំពេញ រហូតមកដល់សព្វថ្ងៃនេះ ។

យោងតាមឯកសារមួយដែលចងក្រងដោយលោកយី ធន់ បានឱ្យដឹងថា ចាប៉ីខ្សែមួយរបស់លោក តាង៉ុយ អាចដោះចេញ ហើយតម្លើងបានភ្លាមៗ កាលណាគាត់ត្រូវការប្រើវា ។ ឃ្លោកនៃចាប៉ីខ្សែមួយ ឬសាយដៀវនោះ គឺលោកដាក់ក្នុងបង្ហិច ហើយឈើច្រត់របស់លោកតាកវី គឺយកមកធ្វើជាដង រួចដាក់ខ្សែ ដែលកើតជាឧបករណ៍ចាប៉ីខ្សែមួយប្រគុំបានភ្លាមៗ ។

**កិត្តិស័ព្ទនៅក្រៅប្រទេស :**

កេរ្តិ៍របស់លោកតាក្រមង៉ុយ ក៏បានសាយភាយរហូតដល់ស្រុកសៀម ។ ស្តេចសៀមនាគ្រានោះបានធ្វើរាជសារមកសុំអញ្ជើញអ្នកភិរម្យភាសាអ៊ូ ទៅច្រៀងថ្វាយនៅឯបាងកក ។ លោកតាកវីយើងបានធ្វើដំណើរទៅកាន់ស្រុកសៀមអស់រយៈពេល៣ខែ ហើយបានទទួលការរាប់អានពីសំណាក់ព្រះមហាក្សត្រ និងមន្ត្រីអ្នកមុខអ្នកការសៀម ។ ពេលនោះស្តេចសៀមបានប្រទានងារជា "ផៃរោះលឿកឹន" ដែលប្រែជាភាសាខ្មែរថា "ពិរោះណាស់" និងប្រទានឡេវអាវប្រាក់ខ្នង ព្រមទាំងប្រាក់កាស និងវត្ថុផ្សេងៗជាច្រើនទៀត ។ នៅក្នុងឯកសារពុំត្រូវបានបញ្ជាក់ប្រាប់ថា លោកអញ្ជើញទៅកាន់ស្រុកសៀម នៅថ្ងៃណា ខែណា ឆ្នាំណាឡើយ ។

**ជីវិតចុងក្រោយ :** អ្នកភិរម្យភាសាអ៊ូ បានទទួលអនិច្ចកម្មនៅថ្ងៃសុក្រ ៦កើត ខែមិគសិរ ឆ្នាំ១៩៣៦ ក្នុងជន្មាយុ ៧១ឆ្នាំ ដោយជម្ងឺទល់លាមក ៕

តមកទំព័រទី ០៤ **ហ្វីឡាដែលហ្វៀ : សមាគមខ្មែរដង្ហោយហៅ...**



ដោយឥតគិតថ្លៃឬក្នុងតម្លៃសមរម្យមួយ ប៉ុន្តែផ្ទុយទៅវិញសមាគមខ្មែរ ហាក់ទទួលបាននូវការគាំទ្រដ៏តិចតួចស្តួចស្តើង រីឯស្ថានភាពហិរញ្ញវត្ថុសម្រាប់ទ្រទ្រង់ជីវភាពសមាគមកាន់តែមានសភាពដុនដាប ។ ព័ត៌មាននានាស្តីពីរឿងរ៉ាវរបស់សមាគមខ្មែរ ឬមានបំណងជួយផ្តល់នូវការគាំទ្រ ដើម្បីជួយសមាគមមួយនេះអាចបន្តនូវការបំរើសេវាកម្មនានាតាមតម្រូវការ និងសម្រាប់ជាប្រយោជន៍រួមក្នុងសហគមន៍សូមអញ្ជើញទូរស័ព្ទទៅកាន់លេខ **(215)324-4070** ឬចូលទៅកាន់គេហទំព័រ **WWW.CAGP.ORG** ៕



តមកទំព័រទី ០១ **ឡូវែល : យុវជន២នាក់សម្លាប់មនុស្ស...**

និង Voeun Sothy អាយុ១៩ឆ្នាំ បានទៅចូលរួមក្នុងកម្មវិធីជប់សៀងនោះដែរ ប៉ុន្តែអ្នកទាំងពីរនោះ មិនត្រូវបានមិត្តភ័ក្តិឯទៀតអញ្ជើញហៅឱ្យមកចូលរួមក្នុងពេលនោះទេ ។ មិនតែប៉ុណ្ណោះអ្នកទាំងពីរ ក៏បានបោះពាក្យសំដីមិនគួរគប្បីនានាទៅលើមិត្តភ័ក្តិឯទៀត រួចហើយក៏បានបាញ់កាំភ្លើងមួយគ្រាប់ទៅលើអាកាស ។ បើតាមសាក្សី និងមន្ត្រីប៉ូលីសមួយរូបសុំមិនបញ្ចេញឈ្មោះបានមានប្រសាសន៍ថា "ប្រមាណជា១៥ក្រោយពីយុវជនទាំងពីរចាកចេញទៅ ពួកគេក៏បានត្រឡប់មកម្តងទៀត ដោយមានកាន់កាំភ្លើងគ្រប់ដៃ ហើយក៏រករឿងដល់មិត្តភ័ក្តិម្តងទៀត រួចក៏បាញ់សំដៅទៅក្រុមមិត្តដទៃទៀត ដែលបណ្តាឱ្យនារីម្នាក់ឈ្មោះ Corinna អាយុ២០ឆ្នាំបានស្លាប់ និង ៧នាក់ទៀតរងរបួសធ្ងន់ ។ យុវជនទាំងពីរខាងលើដែលជាប់ចោទពីបទឃាតកម្មបាញ់សម្លាប់មនុស្សដោយចេតនា ត្រូវគេស្គាល់ថា ជាកូនសិស្សសាលាដែលបានបញ្ចប់ការសិក្សាចេញពីវិទ្យាល័យ Lowell High School ។ ឥឡូវអ្នកទាំងពីរត្រូវបានតុលាការក្រុងឡូវែលសំរេចឃុំខ្លួនបន្តសិនបន្ទាប់ពីយុវជនទាំងពីរគ្មានប្រាក់បង់សុំនៅក្រៅឃុំបណ្តោះអាសន្ន ហើយរង់ចាំការកាត់ក្តីបន្តទៅទៀត ។

**សំគាល់ :** តាមបណ្តោយផ្លូវ Middleses, Dublin, Grand, និង School St,...សុទ្ធសឹងជាផ្លូវដែលតែងតែកើតមានរឿងរ៉ាវនានា ដូចជាជួញដូរកាំភ្លើង ។ គ្រឿងញៀន... ដែលបង្កឡើងដោយក្រុមយុវជនទំនើង ។ ដូច្នោះ លោកអ្នកត្រូវមានការប្រយ័ត្នឱ្យបានខ្ពស់បំផុត ។ សុំទំនាក់ទំនងប៉ូលីសស៊ើបអង្កេត និងប្រតិកម្មរហ័សតាមរយៈលេខ: **(978)-937-3200** ៕

# Stop N' Shop Discount Liquor

2305 Admiral Wilson Blvd., Camden, NJ 08105 ,Phone: (856) 365-4377 Fax: (856) 365-1342




**REMY MARTIN**
V.S.O.P. $35.99 750 ML.
X.O. $99.99 750 ML.

**HENESSY**
**V.O.S.P.**
$39.99
750 ML.



**COURVOISIER**
**XO**
$99.99
750 ML.



**ABSOLUT VOLKA**
$18.09 750 ML.
$29.09 1.75 L.




**Store Hours :**
**Mon. -Thurs.**
**9am - 10pm**
**Fri - Sat. 9am - Midnight**
**Sunday Noon - 10p.m**

**OPEN 365 DAYS**

## Holiday Blowout Sale




鴻發洋酒庄
STOP-N-SHOP
Discount LIQUOR
BIG SEPTEMBER SALE

BEER :

Tsing Tao........12 Oz. 24 Loose Btls. $23.99 / Heineken ........12 Oz. 24 Loose Btls. $23.99

Corona............24 Loose Btls. $23.99 / "33" Export Vietnam........................$29.99

Bud................. 12 Oz. Loose Btls. $15.99 / Sapporo.........12 Oz. 24 Loose Btls. $24.99